ព្រះរាជាណាចក្រកម្ពុជា
ជាតិ សាសនា ព្រះមហាក្សត្រ



សាលាដំបូងខេត្តត្បូងឃ្មុំ

-សំណុំរឿងរដ្ឋប្បវេណី
មិនមែនបណ្តឹង
លេខៈ ១១៦២
ចុះថ្ងៃទី០៥.០៨.២០២២

-លេខៈ **២៥៧៣**
ចុះថ្ងៃទី១៨ ខែសីហា ឆ្នាំ២០២២

# ដីកាសម្រេច
# កែតម្រូវអត្រានុកូលដ្ឋាន

យើង **លី សុខលេង** ចៅក្រមសាលាដំបូងខេត្តត្បូងឃ្មុំ។

-បានឃើញៈ ក្រមនីតិវិធីរដ្ឋប្បវេណី នៃព្រះរាជាណាចក្រកម្ពុជា ដែលបានប្រកាសឲ្យប្រើតាមព្រះរាជក្រមលេខ នស/រកម/០៧០៦/០២១ ចុះថ្ងៃទី០៦ ខែកក្កដា ឆ្នាំ២០០៦។

-បានឃើញៈ ក្រមរដ្ឋប្បវេណី នៃព្រះរាជាណាចក្រកម្ពុជា ដែលប្រកាសឲ្យប្រើតាមព្រះរាជក្រមលេខ នស/រកម/១២០៧/០៣០ ចុះថ្ងៃទី០៨ ខែធ្នូ ឆ្នាំ២០០៧។

-បានឃើញៈ ច្បាប់ស្តីពីនីតិវិធីរឿងក្តីរដ្ឋប្បវេណីដែលមិនមែនជាបណ្តឹងនៃព្រះរាជាណាចក្រកម្ពុជា ដែលបានប្រកាសឲ្យប្រើតាមព្រះរាជក្រមលេខៈ នស/រកម/០៣០៨/០១១ ចុះថ្ងៃទី១០ ខែកក្កដា ឆ្នាំ២០១០។

-បានឃើញៈ អនុក្រឹត្យលេខៈ ១០៣ អនក្រ.បក ចុះថ្ងៃទី២៩ ខែធ្នូ ឆ្នាំ២០០០ ស្តីពីអត្រានុកូលដ្ឋាន។

-បានឃើញៈ អនុក្រឹត្យលេខៈ ៦០ អនក្រ.បក ចុះថ្ងៃទី២៤ ខែមិថុនា ឆ្នាំ២០០២ ស្តីពីការកែសម្រួលមាត្រា ៨ និងមាត្រា ៥៩ នៃអនុក្រឹត្យលេខ ១០៣ អនក្រ.បក ចុះថ្ងៃទី២៩ ខែធ្នូ ឆ្នាំ២០០០ ស្តីពីអត្រានុកូលដ្ឋាន។

-បានឃើញៈ អនុក្រឹត្យលេខៈ ១៧ អនក្រ.បក ចុះថ្ងៃទី១៤ ខែមិថុនា ឆ្នាំ២០០៤ ស្តីពីការកែសម្រួលអនុក្រឹត្យស្តីពីអត្រានុកូលដ្ឋាន។

-បានឃើញៈ អនុក្រឹត្យលេខៈ ១០៦ អនក្រ.បក ចុះថ្ងៃទី២៣ ខែសីហា ឆ្នាំ២០០៥ ស្តីពីការកែសម្រួលចំណុច(ក) និងចំណុច(ខ) មាត្រាថ្មីស្ទួននៃអនុក្រឹត្យលេខៈ ១៧ អនក្រ.បក ចុះថ្ងៃទី១៤ ខែមិថុនា ឆ្នាំ២០០៤ ស្តីពីការកែសម្រួលអនុក្រឹត្យស្តីពីអត្រានុកូលដ្ឋាន។

-បានឃើញៈ សេចក្តីណែនាំអន្តរក្រសួងលេខៈ ០១០ ស.ណ.ន.ម.ថ.កយ/០៧ ចុះថ្ងៃទី២៧ ខែកក្កដា ឆ្នាំ២០០៧ ស្តីពីការកែតម្រូវ និងបំពេញចំណុចខ្វះខាតនៅក្នុងសៀវភៅអត្រានុកូលដ្ឋានគ្រប់ប្រភេទ។

-បានឃើញៈ អនុក្រឹត្យលេខៈ ១១៣ អនក្រ.បក ចុះថ្ងៃទី០៤ ខែកញ្ញា ឆ្នាំ២០១៨ ស្តីពីការកែសម្រួល មាត្រា ៩ និងមាត្រា ៥២ នៃអនុក្រឹត្យលេខ ១០៣ អនក្រ.បក ចុះថ្ងៃទី ២៩ ខែធ្នូ ឆ្នាំ២០០០ ស្តីពីអត្រានុកូលដ្ឋាន។

-បានឃើញៈ សំណុំរឿងរដ្ឋប្បវេណី(មិនមែនបណ្ដឹង) លេខៈ ១១៦២ ចុះថ្ងៃទី០៥ ខែសីហា ឆ្នាំ២០២២ រវាងៈ

-អ្នកដាក់ពាក្យសុំឈ្មោះ **ជុំ ហួន** ភេទប្រុស កើតឆ្នាំ១៩៧៨ ជាតិខ្មែរ មុខរបរ កសិករ ទីលំនៅបច្ចុប្បន្នភូមិ៣ សង្កាត់ទឹកល្អក់២ ខណ្ឌទួលគោក រាជធានីភ្នំពេញ។ ឪពុកឈ្មោះ **ជុំ អួន** (រស់) ម្ដាយឈ្មោះ **អេង ភាង** (រស់) នៅលីវ។

-ភាគីម្ខាងទៀតៈ គ្មាន។

-**កម្មវត្ថុៈ** សុំឱ្យតុលាការចេញដីកាសម្រេចទទួលស្គាល់ឈ្មោះ **ជុំ ហួន** កើតថ្ងៃទី២៧ ខែកញ្ញា ឆ្នាំ១៩៧៨ និងឈ្មោះ ជុំ ហួន កើតថ្ងៃទី២៧ ខែកញ្ញា ឆ្នាំ១៩៧៩ ជាមនុស្សតែម្នាក់។

**អង្គហេតុៈ**

ខ្លួនប្រើប្រាស់ឈ្មោះ ជុំ ហួន និងមានឆ្នាំកំណើតឆ្នាំ១៩៧៨ ដែលខ្លួនធ្លាប់ប្រើប្រាស់សព្វថ្ងៃ ដែលមានប្រើក្នុងសំបុត្រកំណើតលេខ ១២៩៣ ចុះថ្ងៃទី២៧ ខែសីហា ឆ្នាំ២០០៤, សៀវភៅស្នាក់នៅលេខ ៣៦០៩៣ ចុះថ្ងៃទី១១ ខែធ្នូ ឆ្នាំ២០០៤, លិខិតឆ្លងដែនលេខ N០១៩៥៥៧៩៧ ចុះថ្ងៃទី១៥ ខែកុម្ភ ឆ្នាំ២០២១ និងអត្តសញ្ញាណប័ណ្ណសញ្ជាតិខ្មែរលេខ ០១០១៩១៥៨២ (០១)។ ក្រោយមកខ្លួនបានផ្លាស់ប្ដូរទីលំនៅមករស់នៅសង្កាត់ទឹកល្អក់២ ខណ្ឌទួលគោក រាជធានីភ្នំពេញ ហើយបានចុះឈ្មោះខ្លួន ជុំ ហួន កើតឆ្នាំ១៩៧៩ ប្រើនៅក្នុងសញ្ញាប័ត្រមធ្យមសិក្សាកំរិត២លេខ ៦៧១៦២ ចុះថ្ងៃទី១៨ ខែតុលា ឆ្នាំ ១៩៩៦។ ដូច្នេះខ្លួននៅតែប្ដឹងសុំឱ្យតុលាការចេញដីកាសម្រេចទទួលស្គាល់ឈ្មោះ ជុំ ហួន កើតឆ្នាំ១៩៧៨ និងឈ្មោះ ជុំ ហួន កើតឆ្នាំ១៩៧៩ ជាមនុស្សតែម្នាក់ ដើម្បីយកទៅប្រើប្រាស់ឱ្យស្របតាមច្បាប់។

-បានឃើញៈ សំបុត្របញ្ជាក់កំណើតលេខ ១២៩៣ ចុះថ្ងៃទី២៧ ខែសីហា ឆ្នាំ២០០៤ របស់ឈ្មោះ **ជុំ ហួន**។ (ថតចម្លង)

-បានឃើញៈ សេចក្ដីចម្លងសំបុត្របញ្ជាក់កំណើតលេខ ៧៥០១ ចុះថ្ងៃទី២៧ ខែសីហា ឆ្នាំ២០០៤ របស់ឈ្មោះ **ជុំ ហួន**។ (ច្បាប់ដើម)

-បានឃើញៈ សៀវភៅស្នាក់នៅលេខ ៣៦០៩៣ ចុះថ្ងៃទី១១ ខែធ្នូ ឆ្នាំ២០០៤ របស់ឈ្មោះ **យី ឡាយសេង**។ (ថតចម្លង)

-បានឃើញៈ សញ្ញាប័ត្រមធ្យមសិក្សាកំរិត២លេខ ៦៧១៦២ ចុះថ្ងៃទី១៨ ខែតុលា ឆ្នាំ១៩៩៦ របស់ឈ្មោះ **ជុំ ហួន**។ (ថតចម្លង)

-បានឃើញៈ អត្តសញ្ញាណប័ណ្ណសញ្ជាតិខ្មែរលេខ ០១០១៩១៥៨២ (០១) របស់ឈ្មោះ **ជុំ ហួន**។ (ថតចម្លង)

-បានឃើញៈ លិខិតបញ្ជាក់លេខ ០៥៥/២០២២ ល.ប ចុះថ្ងៃទី១៥ ខែសីហា ឆ្នាំ២០២២ របស់ចៅសង្កាត់ទឹកល្អក់២។

**សំអាងហេតុ**

១-តាមអង្គហេតុ តុលាការយល់ឃើញថា អ្នកដាក់ពាក្យសុំ ឈ្មោះ និងឆ្នាំកំណើតរបស់ខ្លួនឈ្មោះ ជុំ ហួន កើតឆ្នាំ១៩៧៩ ដែលធ្លាប់ប្រើប្រាស់តាំងពីចូលរៀនដំបូងរហូតមកមាន សញ្ញាប័ត្រជាបន្តបន្ទាប់ ចំណែកឈ្មោះ ជុំ ហួន កើតឆ្នាំ១៩៧៨ បានប្រើនៅក្នុងសេចក្ដីចម្លងសំបុត្របញ្ជាក់កំណើត, សៀវស្នាក់នៅ,

អត្តសញ្ញាប័ណ្ណ និងលិខិតឆ្លងដែន។ ហេតុនេះ ខ្លួនសុំឱ្យតុលាការចេញដីកាសម្រេចទទួលស្គាល់ឈ្មោះនិងឆ្នាំកំណើតទាំងពីរនេះ ជាមនុស្សតែម្នាក់។

២-តាមការពិនិត្យលើឯកសារសៀវភៅគ្រួសារ, អត្តសញ្ញាណប័ណ្ណ, សេចក្តីចម្លងសំបុត្របញ្ជាក់កំណើត, និងលិខិតឆ្លងដែន បានបញ្ជាក់ថា ឈ្មោះ ជុំ ហួន កើតឆ្នាំ១៩៧៨។ ចំណែកសញ្ញាប័ត្រមធ្យមសិក្សាកំរិត២ បញ្ជាក់ថា ឈ្មោះ ជុំ ហួន កើតឆ្នាំ១៩៧៩។

៣-តាមលិខិតបញ្ជាក់របស់ចៅសង្កាត់ទឹកល្អក់២ ខណ្ឌទួលគោក រាជធានីភ្នំពេញ បានបញ្ជាក់ថា ឈ្មោះ ជុំហួន កើតឆ្នាំ១៩៧៨ និងឈ្មោះ ជុំ ហួន កើតឆ្នាំ១៩៧៩ គឺពិតជាមនុស្សតែម្នាក់ ពិតប្រាកដមែន។

៤-តាមរយៈភស្តុតាង និងការអះអាងរបស់អ្នកដាក់ពាក្យសុំ ឃើញថា ការទាមទាររបស់អ្នកស្នើសុំ គឺមានលក្ខណៈត្រឹមត្រូវ ហេតុនេះដើម្បីជៀសវាងនូវផលវិបាកផ្សេងៗ និងដើម្បីជាប្រយោជន៍ដល់ឈ្មោះ ជុំ ហួន គប្បីតុលាការអនុញ្ញាតទទួលស្គាល់ទិន្នន័យអត្រានុកូលដ្ឋានរបស់ឈ្មោះ **ជុំ ហួន** តាមការទាមទារ។

៥-អ្នកដាក់ពាក្យសុំឈ្មោះ ជុំ ហួន ជាអ្នកដាក់ពាក្យសុំទទួលស្គាល់អត្រានុកូលដ្ឋានសេចក្តីចម្លងសំបុត្របញ្ជាក់កំណើតរបស់ខ្លួន ហេតុនេះ តាមមាត្រា៦៤ នៃក្រមនីតិវិធីរដ្ឋប្បវេណី ប្រាក់ប្រដាប់ក្តីគប្បីជាបន្ទុករបស់អ្នកដាក់ពាក្យសុំ។

**ហេតុដូច្នេះ វិនិច្ឆ័យសេចក្តី**

១.ឱ្យតុលាការចេញដីកាសម្រេចទទួលស្គាល់ឈ្មោះ ជុំ ហួន កើតថ្ងៃទី២៧ ខែកញ្ញា ឆ្នាំ១៩៧៨ និងឈ្មោះ ជុំ ហួន កើតថ្ងៃទី២៧ ខែកញ្ញា ឆ្នាំ១៩៧៩ ជាមនុស្សតែម្នាក់។

២.មន្ត្រីអត្រានុកូលដ្ឋាន និងមន្ត្រីរក្សាសៀវភៅអត្រានុកូលដ្ឋាន ទទួលស្គាល់អត្រានុកូលដ្ឋានរបស់ឈ្មោះ **ជុំ ហួន** ដូចមានក្នុងចំណុចទី១ ខាងលើ។

៣.ប្រាក់ប្រដាប់ក្តីជាបន្ទុករបស់អ្នកដាក់ពាក្យសុំឈ្មោះ **ជុំ ហួន**។

**ចៅក្រម**

ហត្ថលេខា និង ត្រា

**លី សុខលេខ**

---

បានចម្លងត្រឹមត្រូវតាមច្បាប់ដើម

ថ្ងៃព្រហស្បតិ៍ ៧កើត ខែស្រាពណ៍ ឆ្នាំខាល ចត្វាស័ក ព.ស២៥៦៦

ខេត្តត្បូងឃ្មុំ,ថ្ងៃទី១៨ ខែសីហា ឆ្នាំ២០២២

បានឃើញ

**ចៅក្រម**



**លី_សុខលេខ**

**ក្រឡាបញ្ជី**



**អេង_តារា**